# KhmerPost USA

សុបិន : (267) 253-3947, សែម : (781) 244-0522


មាតិការឿង | ទំព័រ




VOL. 06 ISSUE 110 Jul.06th - Jul.19th, 2012


# សាខាបក្ស សម រង្ស៊ី និងសាខាបក្ស សិទ្ធិមនុស្សធ្វើសេចក្តីថ្លែងការណ៍រួមគ្នា

**ដោយ : អ៊ុំ ធឿម**

ថ្មីៗកន្លងមកនេះសាខាបក្សសិទ្ធិមនុស្ស និងសាខា បក្ស សម រង្ស៊ី ប្រចាំរដ្ឋផេនស៊ុីវេនៀ (PA) បានសម្រេចធ្វើសេចក្តីថ្លែងការណ៍រួមគ្នាមួយ ដែលខឹម សាន ផ្តោតលើការពេញចិត្តចំពោះថ្នាក់លើរបស់ខ្លួនក្នុងការផ្តើមឱ្យមានការចងសម្ព័ន្ធ ឬក៏អាចឈានដល់ការច្របាច់បញ្ចូលគ្នាជាបក្សតែមួយដែលជំនួបនោះ និងប្រព្រឹត្តធ្វើឡើងនៅឯទីក្រុងម៉ានិលប្រទេសហ្វីលីពីននាពេលឆាប់ៗខាងមុខនេះ ។

នៅក្នុងញត្តិគាំទ្រដែលចុះនៅថ្ងៃពុធទី ២៧ ខែកក្កដា ឆ្នាំ២០០៧ កន្លងមកនេះ សាខាបក្សប្រឆាំងទាំងពីរបានសន្យាប្តេជ្ញាបន្តបំរើដល់លទ្ធិប្រជាធិបតេយ្យ និងគាំទ្រទាំងស្រុងចំពោះការផ្តួចផ្តើមឱ្យមានការចងសម្ព័ន្ធភាពរវាងគ្នានឹងគ្នាបែបនេះ ។

គេនៅចងចាំបានថា គណបក្សប្រឆាំងទាំង


**តទៅទំព័រទី១២**


**ញត្តិគាំទ្រការចងសម្ព័ន្ធភាពរវាងបក្សប្រឆាំងទាំងពីរ**

យើងខ្ញុំទាំងអស់ជាថ្នាក់ដឹកនាំនៃសាខាគណបក្សសមរង្ស៊ី និងថ្នាក់ដឹកនាំសាខាគណបក្សសិទ្ធិមនុស្សប្រចាំ Pennsylvania មានអំណរយ៉ាងខ្លាំងចំពោះដំណឹងនៃការផ្តើមឱ្យមានការចងសម្ព័ន្ធភាពឬក៏អាចឈានដល់ការច្របាច់បញ្ចូលគ្នាតែមួយរវាងគណបក្សសមរង្ស៊ី និងគណបក្សសិទ្ធិមនុស្សដែលនឹងប្រព្រឹត្តិធ្វើឡើងនៅឯទីក្រុងម៉ានិល នៃប្រទេសហ្វីលីពីននាពេលខាងមុខនេះ។

ចំពោះដំណឹងដ៏ល្អនេះ,យើងខ្ញុំទាំងអស់ជាថ្នាក់ដឹកនាំនិងជាសកម្មជនគាំទ្រគណបក្សប្រឆាំងទាំងពីរ សូមសំដែងនូវការពេញចិត្តយ៉ាងខ្លាំង, ហើយក៏សូមជូនពរឱ្យចំណងនៃជំនួបរបស់លោកប្រធានទាំងពីរក្លាយជាការពិត និងស្អិតរមួតជានិច្ចនិរន្តរ៍។

យើងខ្ញុំទាំងអស់ប្តេជ្ញាគាំទ្រនិងបន្តបំរើដល់លទ្ធិប្រជាធិបតេយ្យដ៏ពិតប្រាកដមួយ ដើម្បីនាំនាវាកម្ពុជាឆ្ពោះទៅកាន់ត្រើយ សុខសន្តិភាព និងស្ថេរភាពក្នុងសង្គមជាតិ។

ធ្វើនៅក្រុង Philadelphia, PA នៅថ្ងៃពុធ ទី២៧ ខែកក្កដា ឆ្នាំ២០១២

ហត្ថលេខា

ប្រធានសាខាគណបក្សសិទ្ធិមនុស្សប្រចាំឆ្នេរខាងកើតនៃស.ហ.រ.អ

សេង សារិន

| | |
|---|---|
| ប្រធានសាខាគណបក្សសម រង្ស៊ីប្រចាំរដ្ឋ Pennsylvania | ប្រធានសាខាគណបក្សសិទ្ធិមនុស្សប្រចាំរដ្ឋ Pennsylvania |
| មាស ជា | រ៉ា សាម៉ុន |

## សមាគមន៍ខ្មែរនៅហ្វីឡាដែលហ្វៀរីករាយ ថ្ងៃបុណ្យឯករាជ្យ៤កក្កដា

# លេខទី១៧-តើទិវាមាតាមានន័យអ្វីសម្រាប់យើង?



**ដោយ : គីម កៀន**

**តពីលេខមុន**

ភ្ញៀវទាំងនោះទូវឃ្លាមួយដ៏សាមញ្ញទៃបង្កប់នូវអត្ថន័យមួយយ៉ាងសង្វេគ ឬសប្បាយរីករាយយ៉ាងខ្លាំងសម្រាប់អ្នកដែលត្រូវបាន គេសួរ: "សុំទោសអ្នកនាងកញ្ញា ឬលោកស្រី ឬលោក តើអ្នកម្ដាយនៅឯផ្ទះបានសុខសបប្បាយទេឬ?" ។ អ្នកបាន គេសួរនេះនឹងមានទឹកមុខស្រពោន ហើយស្រណោះស្រណោកយ៉ាងខ្លាំងបើម្ដាយខ្លួនបានចែកឋានទៅហើយ: "ខ្ញុំគ្មានម្ដាយទេ ម្ដាយខ្ញុំស្លាប់បាត់យូរហើយ!" ។ គេនឹងតបវិញថា :"ខ្ញុំសូមចែករំលែកទុក្ខសោកក្រៀមក្រំនៃការបាត់បង់មាតាជាទីស្រលាញ់នេះផង" ។ និយាយចប់ភ្លាមគេនឹងបំពាក់ជូននៅលើទ្រូងខាងស្ដាំរបស់អតិថិជនរបស់គេនូវផ្កាកូឡាបមួយទងពណ៌ស នេះជាសញ្ញាប្រាប់ឱ្យអ្នកដទៃដឹងថា គេជាជនកំព្រាម្ដាយ ។ ចំពោះជនដែលមានម្ដាយកំពុងនៅរស់រានមានជីវិតវិញ គេនឹងសប្បាយរីករាយឆ្លើយនឹងសំណួរវិញថា : "អូរអរគុណហើយ ! ម្ដាយខ្ញុំគាត់សុខសប្បាយជាទេ ខ្ញុំសប្បាយចិត្តណាស់ដែលបានរស់ជាមួយម្ដាយខ្ញុំរហូតដល់ខ្ញុំមានអាយុ៥០ឆ្នាំឬឃ្លយទៅហើយ !" ។ គេនឹងតបថា: "ពិតជាសំណាងធំហើយ ! ខ្ញុំសុំទទួលចំណែកសបប្បាយរីករាយនៃការដែលបានរស់នៅជិតម្ដាយដ៏កក់ក្ដៅយ៉ាងនេះផង" ។ និយាយចប់ភ្លាមកុឡាបមួយទងក្រហមឆ្អៅបានបំពាក់មកទ្រូងខាងស្ដាំរបស់អ្នកធ្វើអ្នកសប្បាយរីករាយយ៉ាងក្រៃលែងដោយអ្នកដឹងថា គេទាំងឡាយមានក្ដីទុក្ខព្រួយ ព្រោះគេគ្មានម្ដាយឯរូបអ្នកមានមោទភាពណាស់ ដោយអ្នកនៅមានម្ដាយគ្រាន់ហៅថា "ម៉ែៗ" ។ គ្រាន់តែរៀបចំធ្វើប៉ុណ្ណឹងគ្មានអស់លុយកាក់ធំដុំអ្វីសោះ តែអានុភាពនៃក្ដីស្រលាញ់អាណិតដឹងគុណម្ដាយហាក់ដូចពុះតគ្រឹកកព្រោលឡើងឱ្យនឹកឃើញសឹងតែទាំងអស់នូវអ្វីៗកាលនៅកុមារភាពនៅឡើយ ។ សុបិនដឹងទេ ប៉ុន្មានយប់នេះតែងមិនលក់រូបម្ដាយអ៊ុំចេះតែលេចចេញមកស្រស់ៗនៅក្នុងអារម្មណ៍អ៊ុំរហូតដល់អ៊ុំទ្រាំមិនបានក៏ស្រែកថា: "ម៉ែៗ! កូននឹកម៉ែ និងស្រលាញ់ម៉ែណាស់! មកជាមួយកូនមកកូនចង់ឱ្យខ្លួនក្លាយជាកូនង៉ា ហើយម៉ែច្រៀងបំពេរកូនម្ដងទៀត លើអង្រឹងដែលចងដោយខ្សែព្រាត់ក្របីនឹងសរសរផ្ទះបន្លឺសំឡេងក្រេតត្រេកៗដោយសំឡេងយ៉ាងត្រលូចនាំខែចេត្រក្ដៅហែង" ។ ចំរៀងនោះគ្មានពេលណានឹងរលុបពីអារម្មណ៍អ៊ុំទៅ កើតទេ សុបិន អើយ! ។

កូនប្រុសពៅម៉ែកូនតែងទៅ
កុំយំណាំស្ងួនពៅពិសី
ប្រុសព្រលឹងម្ដាយតរៀងទៅ ។
ដំណឹងបាកូនបាត់សូន្យឈឹង **តទៅទំព័រទី១៤**



**KHMER POST USA, LLC**
**East Coast Publication**

**Pin Samkhon,**
*Publisher & Editor-in-Chief*
Email: pinsamkhon@gmail.com
*Staff Writers:* Loeum Im

*Contributed Writers:*
**Mam Yin, Kim Phien**
*Advertising Department*

**Soben Pin**
KhmerPostUSA@gmail.com
**267-253-3947**

**Sam Khoeun**
*Sales Consultant*
**(781) 244-0522**

*Design Staffs:*
**Leang Heng & Mong Meng**

~~~~~~

KhmerPost USA, LLC is an independent newpaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English.
It published twice a month in Pennsylvanian & Massachusett.

~~~~

Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year.
Money order or check is accepted and made payable to:
KhmerPost USA, LLC
438 LINDLEY AVE.
Philadelphia, PA 19120

~~~

The Khmer Post has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# The CPP won 1,591 commune chief seats out of 1,633.

Cambodia: Commune Elections 2012 - Results.

- Preliminary results show that the CPP (Cambodian Peoples Party) won 1,591 seats out of 1,633.
- remaining 42 seats fell to two opposition parties.
- The SRP (Sam Rainsy Party) received the second largest number of votes: The SRP won 22 communes /sub-districts in the whole of the country.
- The Human Rights Party (HRP) won 20 communes/sub-districts in the whole of the country and in Phnom Penh.
- Two highlights concerning forced land eviction dispute areas in Phnom Penh:

- The CPP won all seats in Boeung Kak Lakes in Phnom Penh: The CPP won 1061 votes, the SRP won 759 votes and the HRP won 182 votes.
- Borei Keila: The CPP received 5563 votes and the SRP received 3511 votes.

លទ្ធផលបឋម នៃការបោះឆ្នោតជ្រើសរើស ក្រុមប្រឹក្សាឃុំសង្កាត់ថ្ងៃទី០៣ ខែមិថុនា ឆ្នាំ២០១២ ម៉ោង 04:30 AM

| រាជធានី-ខេត្ត | ឃុំ | អាសនៈ | ឃុំបាន | អាសនៈឃុំ-សង្កាត់តាមគណបក្សនីមួយៗ | | | | | សំឡេងឆ្នោតតាមគណបក្សនយោបាយ | | | | | សរុប |
|---|---|---|---|---|---|---|---|---|---|---|---|---|---|---|
| Province | Com | Seats | ភាគរយ | CPP | SRP | FCP | NRP | HRP | CPP | SRP | FCP | NRP | HRP | Total |
| ប.មានជ័យ | 65 | 515 | 100% | 408 | 72 | 34 | 3 | 0 | 154,714 | 39,045 | 24,078 | 6,317 | 2,350 | 227,923 |
| បាត់ដំបង | 102 | 814 | 100% | 641 | 160 | 10 | 0 | 3 | 262,927 | 80,798 | 20,791 | 5,351 | 7,517 | 381,749 |
| កំពង់ចាម | 173 | 1,353 | 100% | 812 | 297 | 4 | 11 | 229 | 387,899 | 162,538 | 14,913 | 30,260 | 134,058 | 735,975 |
| កំពង់ឆ្នាំង | 69 | 419 | 100% | 301 | 86 | 4 | 8 | 20 | 128,393 | 45,947 | 11,087 | 14,501 | 21,064 | 221,803 |
| កំពង់ស្ពឺ | 87 | 609 | 100% | 409 | 101 | 1 | 5 | 93 | 200,025 | 62,486 | 10,295 | 14,917 | 58,536 | 349,370 |
| កំពង់ធំ | 81 | 577 | 100% | 363 | 158 | 36 | 11 | 9 | 134,166 | 65,096 | 23,311 | 13,397 | 10,263 | 248,148 |
| កំពត | 93 | 561 | 100% | 428 | 100 | 4 | 1 | 28 | 176,892 | 56,396 | 12,033 | 8,982 | 24,423 | 279,021 |
| កណ្ដាល | 127 | 915 | 100% | 649 | 165 | 5 | 0 | 96 | 355,608 | 118,417 | 10,376 | 6,039 | 82,144 | 577,049 |
| កោះកុង | 29 | 167 | 100% | 146 | 21 | 0 | 0 | 0 | 29,720 | 7,350 | 1,908 | 901 | 0 | 39,566 |
| ក្រចេះ | 46 | 282 | 100% | 203 | 70 | 3 | 2 | 4 | 73,063 | 31,827 | 6,374 | 4,882 | 5,737 | 122,297 |
| មណ្ឌលគិរី | 21 | 107 | 100% | 94 | 12 | 1 | 0 | 0 | 13,897 | 2,837 | 1,100 | 28 | 206 | 18,068 |
| ភ្នំពេញ | 96 | 810 | 100% | 570 | 234 | 0 | 0 | 6 | 349,222 | 167,244 | 7,325 | 4,202 | 24,881 | 553,429 |
| ព្រះវិហារ | 51 | 333 | 100% | 241 | 82 | 7 | 1 | 2 | 52,442 | 18,725 | 4,990 | 935 | 1,583 | 79,675 |
| ព្រៃវែង | 116 | 892 | 100% | 523 | 155 | 0 | 4 | 210 | 259,023 | 93,693 | 8,418 | 18,734 | 117,034 | 498,738 |
| ពោធិ៍សាត់ | 49 | 343 | 100% | 316 | 25 | 0 | 0 | 2 | 142,335 | 21,967 | 5,063 | 4,502 | 3,045 | 177,421 |
| រតនគិរី | 50 | 260 | 100% | 222 | 30 | 8 | 0 | 0 | 42,222 | 6,978 | 3,099 | 131 | 0 | 52,430 |
| សៀមរាប | 100 | 668 | 100% | 490 | 146 | 19 | 3 | 1 | 206,620 | 78,942 | 23,775 | 13,550 | 4,192 | 340,300 |
| ព្រះសីហនុ | 27 | 169 | 100% | 142 | 25 | 1 | 0 | 1 | 54,927 | 14,935 | 3,283 | 1,519 | 831 | 75,495 |
| ស្ទឹងត្រែង | 34 | 176 | 100% | 149 | 19 | 7 | 1 | 0 | 32,210 | 7,679 | 2,452 | 1,368 | 0 | 43,709 |
| ស្វាយរៀង | 80 | 518 | 100% | 423 | 62 | 3 | 0 | 30 | 188,157 | 41,644 | 8,715 | 5,972 | 19,718 | 264,418 |
| តាកែវ | 100 | 736 | 100% | 557 | 106 | 4 | 3 | 66 | 309,942 | 79,282 | 15,437 | 9,499 | 54,770 | 469,586 |
| កែប | 5 | 31 | 100% | 31 | 0 | 0 | 0 | 0 | 16,738 | 1,792 | 493 | 0 | 0 | 19,023 |
| ប៉ៃលិន | 8 | 52 | 100% | 41 | 11 | 0 | 0 | 0 | 17,184 | 5,157 | 604 | 463 | 0 | 23,408 |
| ឧត្តរមានជ័យ | 24 | 152 | 100% | 126 | 16 | 9 | 0 | 0 | 49,984 | 10,058 | 7,767 | 2,745 | 1,623 | 72,089 |
| សរុប | 1,633 | 11,459 | 100% | 8,263 | 2,155 | 160 | 53 | 800 | 3,630,290 | 1,221,832 | 227,287 | 169,195 | 573,975 | 5,871,280 |
~~~



# ដំណឹងស្វែករកបងប្អូន

នាងខ្ញុំឈ្មោះ តុល ឆយ រស់នៅទីក្រុងឡូវែល រដ្ឋម៉ាស្សាឈូសែត សូមប្រកាសដំណឹងស្វែករកបងប្អូនស្រីដែលបែកគ្នាពីឆ្នាំ១៩៧៥ នៅពេលដែលពួកខ្មែរក្រហមជម្លាសម្តាយ និងបងប្អូនជីដូន មាមីងខ្ញុំ ពីភូមិបាក់ខែង ឃុំបាក់ខែង ស្រុកមុខកំពូល ខេត្តកណ្តាល (ខណ្ឌឫស្សីកែវរាជធានីភ្នំពេញ) ទៅរស់នៅភូមិទួលខ្មែរ សាលា.សរៀប ខេត្តពោធិសាត់ នៅឆ្នាំនោះ នាងខ្ញុំរស់នៅកោះដាច់ស្រុកមុខកំពូល ខេត្តកណ្តាល ។ នៅឆ្នាំ១៩៧៦ ខ្មែរក្រហមចាត់តាំងឱ្យម្តាយខ្ញុំទៅធ្វើត្រីនៅទន្លេសាប ម្តាយខ្ញុំបានយកប្អូនស្រីពៅអាយុប្រហែល ៥ឆ្នាំ ទៅជាមួយ ឈ្មោះ តុល លីហៀង ម្តាយខ្ញុំហៅ ពៅ។ ។ សូមជំរាបថា ឪពុកខ្ញុំឈ្មោះ តុល ឆាយ ខ្មែរក្រហមយកទៅសម្លាប់នៅចុងឆ្នាំ១៨៧៥ ពីមន្ទីរពេទ្យកសិកម្មព្រែកល្បៀប ម្តាយ ខ្ញុំឈ្មោះ យ៉ង់ យៀប បងស្រីខ្ញុំឈ្មោះ តុល គីមឃឿន បងថ្លៃប្រុស អ៊ួង រ៉ុម ប្អូនស្រី តុល សារ៉ិ ប្អូនប្រុស តុល បុន្នី ប្អូនស្រី តុល វីណា. ប្អូនស្រីពៅ តុល លីហៀង ហៅ ពៅ ។ នៅពេលដែលមិនមានបាយហូបគ្រប់គ្រាន់យាយអ៊ុំ ពូ មីង បងប្អូនខ្ញុំឈឺស្លាប់ជាបន្តបន្ទាប់ ម្តាយខ្ញុំនិងប្អូនស្រីពៅក៏មកពីទន្លេសាប មកនៅភូមិទួលខ្មែរ សាលា.សរៀប មកមើលថែបងប្អូនខ្ញុំវិញ ពេលបងប្អូនខ្ញុំស្លាប់អស់ម្តាយខ្ញុំក៏ធ្លាក់ខ្លួនឈឺ គណសហករណ៍បញ្ជូនទៅពេទ្យនៅស្រុកនោះខ្ញុំដឹងមិនសូវច្បាស់ រួបទាំងប្អូនស្រីពៅ ទៅជាមួយនៅពេលម្តាយខ្ញុំស្លាប់នៅមន្ទីរពេទ្យ ចូលឆ្នាំ១៩៧៧ អ្នកឃើញហេតុការណ៍ពេលនោះក៏យកប្អូនស្រីទៅចិញ្ចឹម បងជីទួតមួយខ្ញុំនៅសហករណ៍ជាមួយក៏ពុំបានស្គាល់ថា អ្នកយកប្អូនស្រីខ្ញុំទៅចិញ្ចឹមនៅឯណាឈ្មោះអ្វីនោះទេ ។ ដូចបានជំរាបជូនដំណឹងខាងលើ បើបងប្អូនណាមានរឿងនឹងដឹងឮរឿងស្រដៀងនេះ សូមទាក់ទងមកនាងខ្ញុំនៅទីក្រុងឡូវែល លេខទូរស័ព្ទ

(978) 45-95-868/(978) 39-43-3093/(978) 91-41-1373

សូមជំរាបនៅឆ្នាំ ១៩៩៧ ខ្ញុំបានឱ្យកាកបាទក្រហមអន្តរជាតិនៅភ្នំពេញរកនៅស្រុកខ្មែរ ស្រុកថៃមិនឃើញទេ ។ បានតែដំណឹងថា អ្នកយកទៅចិញ្ចឹមដំបូងនៅពោធិសាត់ មានយាយម្នាក់នៅស្រុកសូត្រនិគមនៅសៀមរាបសុំបន្តកាកបាតក្រហមសៀមរាបរកមិនឃើញមិនដឹងផ្លាស់ទៅរស់នៅទីណា ។

# ក្លូបូលវិតណេសរាយការណ៍ពីបរិស្ថាននៅកម្ពុជា

**ខ្មែរផ្ទុស ស.រ.អា**

●●● *ការថែរក្សាព្រៃឈើនៅកម្ពុជា ក៏ជាបណ្ដាញមួយនៃការថែរក្សាបរិស្ថានពិភពលោក ដើម្បីឱ្យជីវិតដែលបាន ក៏កើតនៅលើពិភពលោកនោះអាចរស់រានមានជីវិតតាមភាពប្រក្រតីបាន ។ ការបំផ្លិចបំផ្លាញណាមួយទោះមានលក្ខណៈតូចតាចក្តីក៏អាចធ្វើឱ្យខូចលំនឹងនិងសុខភាពពិភពលោកបានយ៉ាងងាយស្រួលដែរ ។*

*នៅកម្ពុជាអង្គការសហប្រជាជាតិបានសង្កេតឃើញមុខរបរជួញដូរមួយប្រកបដោយការបង្កើនគ្រោះថ្នាក់ដល់ប្រជាពលរដ្ឋនៃប្រជាជាតិកម្ពុជាខ្លួនឯង និងដល់ពលរដ្ឋពិភពលោកឯទៀត ដោយសារការកាប់បំផ្លាញព្រៃឈើដ៏សុកសម្បូមិនស្របតាមមូលដ្ឋាននៃកិច្ចការពារបរិស្ថានពិភពលោក ហើយបានក្លាយទៅជាជំរុំនៃការបង្កើតភាពគ្រោះថ្នាក់យ៉ាងជាក់ស្តែងដល់ជីវិតសាធារណក៏ចាត់តាំងអង្គការឯកទេសខាងកិច្ចថែទាំព្រៃឈើឈ្មោះ Global withness មកធ្វើការស៊ើបអង្កេតហើយធ្វើការវាយតម្លៃពីមុខរបរជួញដូរនោះ ។ ចាប់តាំងពីឆ្នាំ១៩៩៣មកអង្គការនេះបានធ្វើការផ្សព្វផ្សាយពីការងារស៊ើបអង្កេតបង្កើនតម្លាភាពជូនប្រជាពលរដ្ឋ និងអ.ស.ប ក៏ប៉ុន្តែកិច្ចការនេះបានត្រូវអាជ្ញាធរខ្មែរខឹតខំទប់ស្កាត់រហូតដល់ធ្វើឱ្យអង្គការនេះខ្វាតចេញពីការស៊ើបអង្កេតបង្ហាញ តម្លាភាពដល់ពលរដ្ឋខ្មែរថែមទៀត ។ ហេតុអ្វី? នៅឆ្នាំ២០០៧ មានសេចក្តីរាយការណ៍ពោរពេញដោយព័ត៌មានជាក់ស្តែង និងភស្តុតាងភ្ជាប់មកជាមួយប្រកបដោយភាពឯករាជ និងក្លាហានគ្រប់គ្រាន់ដែលខ្មែរផ្ទុស ស.រ.អា សូមលើកយកមកជូនសាធារណជនភាគច្រើនពុំដែលបានឃើញសេចក្តីរាយការណ៍របៀបនេះពីប្រទេសរបស់ខ្លួននៅឡើយទេ ។*

*ការយកមកផ្សាយនូវសេចក្តីរាយការណ៍ Global Withness នេះនៅថ្ងៃនៃបុណ្យឯករាជ្យស.រ.អា ពីព្រោះយើងចង់រំលឹកកម្លាំងដ៏មហិមានៃសេរីភាពរបស់មនុស្សជាតិ និងរំលឹកដល់វិញ្ញាណក្ខន្ធនៃអ្នកតស៊ូបូជាជីវិតដើម្បីបរិស្ថាន ពិភពលោក ដូចជា វិរៈបុរស ឈុត វុទ្ធី ជាដើម ៕*

## អនុសាសន៍

### អាជ្ញាធរយុត្តិធម៌របស់ប្រទេសកម្ពុជាគួរតែ :

**១. រៀបចំទំនួលខុសត្រូវឱ្យអ្នកទាំងឡាយ ដែលទទួលខុសត្រូវចំពោះការកាប់ឈើខុសច្បាប់ និងបទល្មើសពាក់ព័ន្ធ**

- ស៊ើបអង្កេត និងកាត់ទោសរាល់អ្នកទាំងអស់ដែលទទួលខុសត្រូវចំពោះករណីកាប់ឈើខុសច្បាប់អំពើពុករលួយ ការរត់ពន្ធ ការធ្វើឃាត និងការចាប់ពង្រត់ដែលបានគ្រោងទុក ដូចមានរៀបរាប់លំអិតក្នុងរបាយការណ៍នេះ ។
- កំណត់អាទិភាពការស៊ើបអង្កេតផ្នែកខាងក្រោមនេះ : ចាន់ សារុន[១] រដ្ឋមន្ត្រីក្រសួងកសិកម្ម រុក្ខាប្រមាញ់ និងនេសាទ, ទី សុគន្ធ[២] ប្រធានរដ្ឋបាលព្រៃឈើ (FA), ឧត្តមសេនីយ៍ឯក ហ៊ីង ប៊ុនហៀង[៣] មេបញ្ជាការ កងអង្គរក្ស ហ៊ុន សែន, ឧត្តមសេនីយ៍ត្រី ហាក់ ម៉ៅ[៤] កងពលតូចលេខ ៧០, ឌី ចូច[៥] អ្នកដឹកនាំក្រុមកាប់ឈើ, សេង គាង[៦], ឃុន ថុង[៧], និង សេង កុកហ៊ាង[៨] ។

### រាជរដ្ឋាភិបាលកម្ពុជា (RGC) ត្រូវតែ :

**១. រៀបចំទំនួលខុសត្រូវឱ្យអ្នកទាំងឡាយ ដែលទទួលខុសត្រូវចំពោះការកាប់ឈើខុសច្បាប់ និងបទល្មើសពាក់ព័ន្ធ**

- គាំទ្រដល់កិច្ចខិតខំប្រឹងប្រែងរបស់អាជ្ញាធរយុត្តិធម៌ ដើម្បីស៊ើបអង្កេត និងកាត់ទោសអ្នកទាំងឡាយណា ដែលទទួលខុសត្រូវចំពោះសកម្មភាពខុសច្បាប់ដូចមានរៀបរាប់លំអិតក្នុងរបាយការណ៍នេះ ។
- បណ្តេញចេញនូវរដ្ឋមន្ត្រីរបស់រដ្ឋាភិបាល មន្ត្រី នាយទាហានទាំងឡាយ ដែលទទួលខុសត្រូវចំពោះសកម្មភាពខុសច្បាប់ទាំងនេះ ។

**២. ការពារព្រៃឈើនៅព្រៃឡង់**

- ដកព្រៃឡង់ដែលជាព្រៃឈើបៃតងទំនាបធំជាងគេបំផុតរបស់អាស៊ីអាគ្នេយ៍ដីគោកចេញពីផលិតកម្ម ។ បង្កើតរបបគ្រប់គ្រងឆ្លាស់សម្រាប់ព្រៃឡង់ដោយផ្អែកតាមការពិគ្រោះយោបល់ជាមួយប្រជាជនមូលដ្ឋាន ដែលកំណត់អាទិភាពដល់ការអភិរក្ស និងការរក្សាសុវត្ថិភាពដល់សិទ្ធិប្រើប្រាស់របស់ប្រជាជនដែលរស់នៅក្នុង និងជុំវិញព្រៃ ។

**៣. កែទម្រង់ការគ្រប់គ្រងព្រៃឈើ**

- ដាក់ឱ្យដូចដើមនូវការត្រួតពិនិត្យព្រៃឈើដោយឯករាជ្យ (IFM) ដោយផ្អែកតាមក្របខណ្ឌស្ថាប័នរឹងមាំ និងលក្ខខណ្ឌសំអាង បន្ទាប់ពីការពិគ្រោះយោបល់ជាសាធារណៈមួយរយៈពេលរួចមក ។ តែងតាំងអង្គការដែលមានលក្ខណៈសម្បត្តិគ្រប់គ្រាន់ ដោយផ្អែកតាមមូលដ្ឋាននៃដំណើរការស្នើសុំជាចំហ ដែលធ្វើឡើងស្របតាមការអនុវត្តប្រសើរបំផុតជាអន្តរជាតិ ។
- បញ្ឈប់រាល់ប្រព័ន្ធផ្តល់សម្បទានកាប់ឈើ ស្របជាមួយអនុសាសន៍របស់ការវាយតម្លៃវិស័យព្រៃឈើដោយឯករាជ្យ (IFSR) ឆ្នាំ ២០០៤[៥] ។
- លុបចោលផែនការណែនាំប្រព័ន្ធថ្មីនៃការផ្តល់ឱ្យការដេញថ្លៃ (កាប់ឈើ) ប្រចាំឆ្នាំ។
- បញ្ឈប់រាល់សម្បទានដីសេដ្ឋកិច្ច (ELCs) និងសម្បទានរ៉ែដែលមានទីតាំងនៅតំបន់ព្រៃ ឬបើពុំនោះទេ ផ្ទុយទៅនឹងច្បាប់ដែលមានស្រាប់ ។
- បង្កើតរបបគ្រប់គ្រងព្រៃឈើថ្មីមួយដោយផ្អែកលើអនុសាសន៍របស់ IFSR ។ នេះត្រូវផ្តោតលើព្រៃសហគមន៍ ពង្រីកព្រៃភាពជាដៃគូ និងកម្មវិធីអភិរក្សទស្សនីយភាព[i] ។
- ទទួលស្គាល់ការអះអាងបញ្ជាក់ពីមុនរបស់ជនជាតិភាគតិចតាមតម្រូវដោយច្បាប់ភូមិបាលក្នុងការកំណត់ស្ថានភាព និងការប្រើប្រាស់តំបន់ព្រៃ ។
- ធានាថាការកាប់ឈើ និងការបណ្តក់ទុនដាំដើមឈើនាពេលអនាគត បំពេញតាមបទដ្ឋានក្រុមប្រឹក្សាគ្រប់គ្រងព្រៃឈើ (FSC) ឬសមមូល ហើយស្របតាមការពិគ្រោះយោបល់ជាមួយសហគមន៍ដែលប៉ះពាល់ ។
- បំពេញ និងអនុម័តច្បាប់តំបន់ការពារថ្មី និងរាល់អនុក្រឹត្យ និងប្រកាស (សេចក្តីប្រកាសថ្នាក់ក្រសួង) ដែលមានទាំងអស់ដែលតម្រូវស្ថិតក្រោមច្បាប់ព្រៃឈើឆ្នាំ២០០២ ។ ធានាថា ពង្រាងត្រូវបានធ្វើឡើងឱ្យអាចទទួលបានជាសាធារណៈមុនពេលអនុម័ត ដែលអនុញ្ញាតឱ្យមានពេលវេលាគ្រប់គ្រាន់សម្រាប់ការផ្តល់យោបល់ជាសាធារណៈ ។
- ដាក់កំណត់ការបញ្ឈប់សាងសង់ផ្លូវតាមរយៈតំបន់ព្រៃស្របជាមួយអនុសាសន៍របស់ IFSR ឆ្នាំ ២០០៤ ។

[i] ព្រៃភាពជាដៃគូ ជាគំរូថ្មីមួយ ដែលស្នើដោយការពិនិត្យវិស័យព្រៃឈើដោយឯករាជ្យឆ្នាំ ២០០៤ ។ វានឹងផ្តល់ឱ្យសិទ្ធិកាន់តែទូលំទូលាយក្នុងការធ្វើសេចក្តីសម្រេចចិត្តគ្រប់គ្រងព្រៃឈើចំពោះក្រុមប្រឹក្សាឃុំ ដែលបានជ្រើសរើសដោយរដ្ឋបាលព្រៃឈើដើរតួនាទីចេញច្បាប់ ។

**៣. កែទម្រង់ការគ្រប់គ្រងព្រៃឈើ**

- ដាក់ឱ្យដូចដើមនូវការត្រួតពិនិត្យព្រៃឈើដោយឯករាជ្យ (IFM) ដោយផ្អែកតាមក្របខណ្ឌស្ថាប័នរឹងមាំ និងលក្ខខណ្ឌសំអាង បន្ទាប់ពីការពិគ្រោះយោបល់ជាសាធារណៈមួយរយៈពេលរួចមក ។ តែងតាំងអង្គការដែលមានលក្ខណៈសម្បត្តិគ្រប់គ្រាន់ ដោយផ្អែកតាមមូលដ្ឋាននៃដំណើរការស្នើសុំជាចំហ ដែលធ្វើឡើងស្របតាមការអនុវត្តប្រសើរបំផុតជាអន្តរជាតិ ។
- បញ្ឈប់រាល់ប្រព័ន្ធផ្តល់សម្បទានកាប់ឈើ ស្របជាមួយអនុសាសន៍របស់ការវាយតម្លៃវិស័យព្រៃឈើដោយឯករាជ្យ (IFSR) ឆ្នាំ ២០០៤[៥] ។
- លុបចោលផែនការណែនាំប្រព័ន្ធថ្មីនៃការផ្តល់ឱ្យការដេញថ្លៃ (កាប់ឈើ) ប្រចាំឆ្នាំ។
- បញ្ឈប់រាល់សម្បទានដីសេដ្ឋកិច្ច (ELCs) និងសម្បទានរ៉ែដែលមានទីតាំងនៅតំបន់ព្រៃ ឬបើពុំនោះទេ ផ្ទុយទៅនឹងច្បាប់ដែលមានស្រាប់ ។
- បង្កើតរបបគ្រប់គ្រងព្រៃឈើថ្មីមួយដោយផ្អែកលើអនុសាសន៍របស់ IFSR ។ នេះត្រូវផ្តោតលើព្រៃសហគមន៍ ពង្រីកព្រៃភាពជាដៃគូ និងកម្មវិធីអភិរក្សទស្សនីយភាព[i] ។
- ទទួលស្គាល់ការអះអាងបញ្ជាក់ពីមុនរបស់ជនជាតិភាគតិចតាមតម្រូវដោយច្បាប់ភូមិបាលក្នុងការកំណត់ស្ថានភាព និងការប្រើប្រាស់តំបន់ព្រៃ ។
- ធានាថាការកាប់ឈើ និងការបណ្តក់ទុនដាំដើមឈើនាពេលអនាគត បំពេញតាមបទដ្ឋានក្រុមប្រឹក្សាគ្រប់គ្រងព្រៃឈើ (FSC) ឬសមមូល ហើយស្របតាមការពិគ្រោះយោបល់ជាមួយសហគមន៍ដែលប៉ះពាល់ ។

តទៅលេខក្រោយ

# ប្រេសក្លឹបនៅរូបើន

## ថ្ងៃទី ០៤ ឧសភា ២០១២ (ត និងចប់)

**ស ផៃល :** ខ្ញុំមកនេះគ្រាន់តែចង់ជម្រាបអំពីលទ្ធភាពសម្រាប់ឱ្យកូនចៅរៀនសូត្រ គឺយើងអាចធ្វើបានប្រសើរជាងពេលនេះ -កូនចៅទៅរៀនសាលាល្អៗសាលាឯកជនបាន ប្រសិនបើយើងខិតខំហើយគិតឱ្យបានជ្រៅពីអ្វីដែលយើងត្រូវធ្វើសម្រាប់កូនយើង ។



ចំណែកខ្ញុំៗបានត្រៀមនឹងបង្ហាត់កូនខ្ញុំទាំងកាយសម្បទាផងទាំងកិច្ចសន្យារបស់ពួកគេដោយការយកចិត្តទុកដាក់ខ្ពស់អស់រយៈពេលច្រើនឆ្នាំ ឥឡូវកូនប្រុសខ្ញុំបានក្លាយទៅជាយុវជនជម្រើសជាទីសង្ឃឹមនៃសាលារៀនដែលគេចំណាយប្រាក់ច្រើនម៉ឺន ហើយដឹកនាំដោយគ្រូជំនាញផ្ទាល់ខ្លួនទៅរៀននៅសាលាដ៏មានឈ្មោះល្បីថែមទៀត ។ ខ្ញុំនិយាយនេះពីព្រោះថា បើខ្ញុំធ្វើបានលោកអ្នកក៏អាចធ្វើបានដូចគ្នា ហើយបើលោកអ្នកមានស្គាល់យុវជនដែលមានទេពកោសល្យឆ្នើមអ្វីមួយ ហើយចង់បណ្តុះបណ្តាលឱ្យទៅឆ្ងាយដោយមានការគាំទ្រ ដូចដែលខ្ញុំធ្វើបានចំពោះកូនខ្ញុំ សូមនាំដំណឹងនេះមកឱ្យមកឱ្យដល់ខ្ញុំ ខ្ញុំស្វែងរកយុវជននោះ ដើម្បីជួយឱ្យមានឱ្យមានការគាំទ្រឧបត្ថម្ភទាំងការរៀនទាំងការហាត់ហ្វឹកហ្វឺនកីឡាតខ្ពស់ទៅបាន ។

**មាស សែម :** ខ្ញុំចង់ជម្រាបថា ខ្ញុំឈរឈ្មោះជាបេក្ខជនម្តងទៀតហើយ នៅអេទិចនៃរដ្ឋម៉ាសាឈូសែត -ខ្ញុំសូមមកធ្វើការឃោសនាសម្រាប់ខ្លួនខ្ញុំទេ តែចង់ជម្រាបទាំងអស់គ្នាឱ្យអញ្ជើញទៅបោះឆ្នោត ពីព្រោះបើមិនទៅបោះឆ្នោតទេ ខ្ញុំឃោសនាក៏ឥតមានប្រយោជន៍លោក អ្នកដឹងទេថា លោក ហុង ណោត ឈ្នះជា Councilor នេះ ឈ្នះលើសគេប៉ុន្មានសំឡេង ?



តទៅទំព័រទី១៥

# វិធីបន្ធូរនិងលំហែកាយនិងចិត្ត និងក្រេបជញ្ជក់រស់ជាតិជីវិត

# Method how to relax mind and body in order to enjoy life.



**តពីលេខមុន**

(3)ឥឡូវចូរទំលាក់សតិចុះពីខួរក្បាលមកដងខ្លួនវិញ តើអ្នកពិសោធន៍ឃើញអ្វីខ្លះ? អ្នកអាចពិសោធន៍វេទនានានាលើរូបកាយទាំងមូល Body sensations ដូចជា ដំណើរកន្ត្រាក់របស់បេះដូង របស់ជីបចរ ញ័រសាច់ ការចុកចាប់ត្រង់នេះបន្តិចត្រង់នោះបន្តិច ស្ពឹក ក្តៅ ត្រជាក់ រងារ ញ័រទ្រូង ស្រយុង ធន់ត្រឌុក១ ស្រាលខ្លួន សើកប្រហោងពោះធ្លុង ដង្ហើមធូរតឹង រួយចង្កេះ ភាពញ័រ១ ព្រឹលភ្នែក រួយស្មា ទន់ត្របកភ្នែក ឡើងស្លេះកូរពោះ ។ល។ មានវេទនាជាច្រើនយ៉ាងទៀតដែលកំពុងផុះឡើងក្នុងរូបកាយយើង ហើយយើងជាម្ចាស់ខ្លួនរកពាក្យដាក់ពុំបានផង។

ពិសោធន៍ដូចខ្ញុំរៀបរាប់ក្នុងចំណុច (1)តាមរយៈវិញ្ញាណទាំង៥ (2)តាមរយៈខួរក្បាល និង(3)តាមរយៈពិសោធន៍វេទនាទាំងឡាយលើរូបកាយ នាពេលនេះ ម៉ោងនេះ នាទីនេះ វិនាទីនេះ គេហៅថា ពិសោធន៍វេទនាពហុញ្ញាណពីខណៈមួយទៅខណៈមួយ Multi sensual sensation experiences moment by moment ។ ពិសោធរបៀបនេះមានពិតលើរូបយើងម្នាក់១ នាខណៈនេះតែម្តង ថ្វីត្បិតតែពិសោធន៍ទាំងនោះខុស១គ្នា ហើយប្រែប្រួលជានិច្ចក៏ដោយចុះ។ មនុស្សច្រើន មាននិន្នាការរំលងពុំនឹកភ្លឹកគិតគូរដល់រាល់ហេតុការណ៍ដ៏សាមញ្ញតែមានតម្លៃអស្ចារ្យ ។

**ចំណុចកត់សំគាល់ :**

(k)បើអ្នកកំពុងអានឯកសារនេះអ្នកតម្រង់សតិមករកខ្លឹមសារវាអ្នកពុំអាចមានពិសោធន៍វេទនាពហុញ្ញាណដ៏ទៃទៀតឡើយ ។ មានន័យថា អ្នកពុំអាចមានពិសោធវេទនាពហុញ្ញាណដ៏ទៃទៀតបាន បើអ្នកពុំបង្វែរសតិដឹងទៅកាន់ទីនោះទេ ។ បើកំពុងស្លុងនឹងអត្ថបទនេះ អ្នកពុំអាចឮសូរសត្វយំនាមាត់បង្អួចឡើយ តែបើអ្នកឈប់អានមួយភ្លែតហើយបង្វែរសតិដឹងទៅលើបាតុភូតជុំវិញនោះ អ្នកនឹងទទួលពិសោធសព្វយ៉ាងភ្លាម១ ដូចជា ឮសូរចាបយំ ខ្យល់បក់ស្លឹកឈើ រថយន្តបើកខាងក្រៅផ្ទះសម្លេងនាឡិការប៉ោលតុកតាក់១១ ឮដំណើរបេះដូងកុក១ក្នុងខ្លួន ។ល។ ចំណុចដូចពោលមកនេះយើងជាមនុស្សមានសិទ្ធិ និងសមត្ថភាពអាចបិត ឬបើកពិសោធន៍វេទនាពហុញ្ញាណទាំងនោះបាន ។ ប៉ុន្តែក្នុងសភាពជាក់ស្តែងយើងច្រើនទំលាប់បិតជិតឈឹងជាហេតុបណ្តាលឱ្យយើងរស់នៅក្នុងរង្វង់ជីវិតតូចចង្អៀតពោរពេញទៅដោយទុក្ខសោករាប់រយពាន់ម៉ឺនសែនជំពូក។ តើទំលាប់បិតជិតឈឹងរបៀបណានោះ ខ្ញុំនឹងជំរាបជូនក្នុងជំពូកក្រោយ១ទៀត។

(x) ពិសោធន៍វេទនាពហុញ្ញាណមានពីរយ៉ាង : (1)ពិសោធន៍វេទនាពហុញ្ញាណដោយពុំផ្ទាល់ indirect multi sensual sensation experiences (2)ពិសោធន៍វេទនាពហុញ្ញាណដោយផ្ទាល់ Direct multi sensual sensation experiences ។

A ពិសោធន៍វេទនាពហុញ្ញាណដោយពុំផ្ទាល់ Indirect multi sensual sensation experiences :

កុមារតូចអាយុកន្លះឆ្នាំឬមួយឆ្នាំ គេមានខួរក្បាលសស្អាតផូរផង់ ដោយពុំទាន់ថតចម្លងអ្វីចូលឡើយ ។ ក្មេងតូចនេះពិសោធវេទនាពហុញ្ញាណដោយផ្ទាល់ ពីព្រោះខួរក្បាលគេនៅទំនេរសស្អាត ។ ខួរក្បាលក្មេងតូចគ្មានពាក្យពេជ្ជ គ្មានសញ្ញាណ គ្មានរូបភាពអ្វីឡើយ ផ្ទៃចិត្តរបស់វាល្អផូរផង់ណាស់ វាពុំស្គាល់ថា ខ្លួនវាជានណាផង វាពុំចេះភូតភរឬមានបំណងអាក្រក់ណាមួយឡើយ ។ បើវាឃើញភ្លើងគឺឃើញតែភ្លើងប៉ុណ្ណោះ វាគ្មានពាក្យសំគាល់ វាពុំយល់ន័យក្តៅ ត្រជាក់ គ្មានគំនិត គ្មានទស្សនទានអ្វីឡើយ ( no conceptions ) ។

លុះដល់ក្មេងតូចនេះចំរើនវ័យធំឡើង គ្រួសារ សាលាសង្គមទាំងមូលបានបញ្ចូលប្រូក្រាម សញ្ញាណ ពាក្យពេចន៍ ទស្សនទាន រឿងរ៉ាវនានា អារ្យធម៌ វប្បធម៌ ទៅក្នុងខួរក្បាលវា នាំឱ្យកើតឡើងនូវបុគ្គលិកមនុស្ស Personality ទំលាប់ផ្សេង១ និន្នាការផ្សេង១ ទស្សនៈផ្សេង១ ជំនឿផ្សេង១ ទៅតាមមជ្ឈដ្ឋានវារស់នៅ។ ឧទាហរណ៍ មនុស្សបីនាក់ឈរនៅពីមុខភ្នំមួយប្រកបដោយព្រៃប្រឹក្សាបៃតងស្រងាត់ ។ ជនទី១ជាពាណិជ្ជករគាត់គិតឃើញថា ភ្នំនេះគួរយកជាកន្លែងសំរាប់អ្នកទេសចរមកកំសាន្តជាទីមនោរម្យក្រៃលែង ហើយវានឹងបង្កើតចំណូល និងការងារដ៏ច្រើនសំបើម។ ជនទីពីរជាមេចោរគេនិយាយថា ភ្នំប្រកបដោយព្រៃស្រោងបែបនេះ គួរជាទីជំរកសំរាប់លាក់បំពួនទ្រព្យសម្បត្តិ និងរក្សាសុវត្ថិភាពដល់ពួកចោរទៀតផង។ ចំណែកឯជនទីបីជាលោកអាចារដ៏ល្បីឈ្មោះគាត់គិតថា ភ្នំនេះសមជាកន្លែងទីសប់សាត់សំរាប់ស្ងឹងស្ងាត តាំងសមាធិមនុស្សនានាអាចនឹងរកឃើញផ្លូវរួចរំដោះសំរាប់ជីវិត។ ទស្សនៈជនទាំងបីនាក់នេះ ខុសគ្នាអាស្រ័យដោយ គេរស់នៅទីមជ្ឈដ្ឋានប្រវត្តិផ្សេង ទីដ្ឋានផ្សេង ម៉េម៉ូរីការចងចាំកត់ត្រាផ្សេងគ្នា លក្ខខណ្ឌផ្សេង Conditioning phenomenon ។ ការពិសោធន៍វេទនាពហុញ្ញាណ ដែលអាស្រ័យដោយម៉េម៉ូរីជាកត្តាកំណត់ដោយការចងចាំដោយការគិតពិចារណា ដោយប្រើខួរក្បាល ដូចពោលខាងលើនេះ ឈ្មោះហៅថា ពិសោធន៍វេទនាពហុញ្ញាណដោយពុំផ្ទាល់ ។ ឧទាហរណ៍តូចមួយដូចជាអ្នកឃើញផ្កាកូឡាបមួយទងភ្លាមនោះខួរក្បាលអ្នក និងម៉េម៉ូរីដែលអាត់ទុកជាយូរលង់មកហើយបានខ្ទាក់មកក្រៅធ្វើឱ្យស្រមៃឃើញរឿងភាពយន្តក្នុងនោះ បុរសម្នាក់កំពុងហុចផ្កាកូឡាបមួយទងជូនដល់សង្សារអ្នកទទួលអារម្មណ៍ផ្អែមល្ហែមនៃស្នេហារដ៏បរិសុទ្ធប្រហែលពេលនេះអ្នកភ្លេចគិតដល់ផ្កាកូឡាបពិត១ចំពោះមុខនេះទៀតផង។ **តទៅលេខក្រោយ**

# ប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ រ.ជ.រ.ប.ខ លោកតា សឺន សាន



ដោយ : ម៉ម ឈឺន

(តពីលេខមុន)

ទើបកងទ័ពយួនក្រហមបានរិះរកវិធីកំចាត់ចោលចលនាព្រលឹងខ្មែរនេះឱ្យរលំរលាយទៅវិញ ។

កងទ័ពយួនក្រហមបានយកវិធីដ៏ល្អពិសេសមួយមកអនុវត្តន៍ក្នុងការកំចាត់កំចាយ គឺយួនបានបង្កើតចលនាមួយមានឈ្មោះថា ព្រលឹងខ្មែរដូចគ្នា មានការប្រជុំនិយាយពន្យល់ណែនាំប្រជាពលរដ្ឋខ្មែរដូចគ្នា ។ បន្ទាប់មកយួនបញ្ជូនក្រុមនេះឱ្យចូលកមករួមប្រជុំជាមួយ ចលនាព្រលឹងខ្មែរពិតប្រាកដនេះទៀត បណ្តាលឱ្យមេដឹកនាំចលនាព្រលឹងខ្មែរពុំបានចាប់អារម្មណ៍នឹកស្មានថា ជាចលនារបស់ខ្លួនមានការរីកលូតលាស់កាន់តែខ្លាំងឡើង ហើយក៏ចេះតែធ្វើត១មក ។

ស្រាប់តែថ្ងៃ១ឃើញកងទ័ពយួននាំគ្នាដើររកចាប់សកម្មជនមួយម្តង១យកទៅដាក់គុក ។ ពេលនោះហើយ ទើបមានសកម្មជនខ្លះចាប់ផ្តើមដឹងថា ការសម្ងាត់របស់ខ្លួន ត្រូវកងទ័ពយួនការណ៍ដឹងច្បាស់អស់ហើយ ក៏ចាប់ផ្តើមនាំគ្នារត់គេចខ្លួនពួនអាត្មាយ៉ាងភ័យស្លន់ស្លោ រហូតដល់មេដឹកនាំចលនាសំខាន់១ខ្លះ ត្រូវតែរត់គេចចេញចោលចលនាដែរ មានជាអាទិ៍លោកបណ្ឌិត ហ៊ុងគុនថុន ជាអតីតប្រធានធនាគារជាតិតកម្ពុជា លោកតាន់ គឹមផៃ និងសកម្មជនមួយចំនួនទៀតបានធ្វើដំណើរទៅកាន់ព្រំប្រទេសដែនខ្មែរ-សៀម ដើម្បីទៅរួមរស់ជាមួយរណសិរ្សរំដោះប្រជាពលរដ្ឋខ្មែរ ដែលកំពុងធ្វើសកម្មភាពប្រយុទ្ធយ៉ាងសកម្មបំផុត ទៅលើកងទ័ពយួនក្រហម និងក្រុមមេដឹកនាំដែលកងទ័ពយួនបានបន្តុបឡើងនៅថ្ងៃទី៧ ខែមករា ឆ្នាំ១៩៧៩នោះ ។

កងទ័ពយួនក្រហមនៅតែធ្វើសកម្មភាពកំចាត់កំចាយចាប់ដាក់គុកសកម្មជនស្នេហាជាតិពិតប្រាកដដូច្នេះតើមិនមែនបង្ហាញឱ្យឃើញនិងដឹងថា កងទ័ពយួនក្រហម គឺជាអ្នកចូលមកលុកលុយវាយប្រហារដើម្បីយកប្រទេស និងជនជាតិខ្មែរឱ្យទៅនៅក្រោមការត្រួតត្រាគ្រប់គ្រងរបស់យួនក្រហមទេ ឬអី? ហើយជាការបំបិទសិទ្ធិសេរីភាពជនជាតិខ្មែរទេឬអី ?

នេះហើយ ជានយោបាយដ៏ល្អប្រសើររបស់មេដឹកនាំប្រទេសខ្មែរ ក្រោយឆ្នាំ១៩៥៣ ដែលបានធ្វើឱ្យឯករាជ្យភាពខ្មែរ នៅក្នុងគ្រប់វិស័យ គឺវិស័យសេដ្ឋកិច្ច វិស័យបូរណភាព និងអធិតេយ្យភាពទឹកដី វិស័យនយោបាយ វិស័យខ្មែរពេញច្បាប់ដោយងាយស្រួលទៀត ហើយ និងមានការរីកចំរើនលូតលាស់ល្អប្រសើរដទៃទៀតជាច្រើនដែលសុទ្ធសឹងពោរពេញទៅដោយការឈានទៅដល់សេចក្តីវិនាសមហន្តរាយដល់ផលប្រយោជន៍របស់ប្រទេសនឹងជនជាតិខ្មែរពិត១ រហូតបណ្តាលឱ្យប្រទេស និងជនជាតិខ្មែរ និងត្រូវបាត់បង់បន្តិចម្តង១ទៅអនាគតមានន័យថា ប្រទេស និងជនខ្មែរត្រូវតែធ្លាក់ទៅក្នុងអំណាចត្រួតត្រាគ្រប់គ្រងដឹកនាំរបស់ប្រទេសយួននេះពិតប្រាកដណាស់ ចៀសពុំរួចឡើយ ។ ពីព្រោះតាំងពីថ្ងៃទី៧ខែមករា ឆ្នាំ១៩៧៩មក ប្រទេសយួនវៀតណាមសង្គមនិយមបានទទួលជោគជ័យក្នុងផែនការវៀតណាមូបនីយកម្មគ្រប់គ្រងប្រទេស និងជនជាតិខ្មែរនេះជាស្ថាពរសព្វគ្រប់អស់ទៅហើយ ។ រួចហើយប្រទេសយួនបានបញ្ជូនមន្ត្រីក្របខ័ណ្ឌថ្នាក់ដឹកនាំគ្រប់គ្រងស្ថាប័នទាំងរដ្ឋបាល



នៅមានតលេខក្រោយ

## តមកទំព័រទី ១ សាខាបក្ស សម រង្ស៊ី និងសាខា...

ពីរក៏ធ្លាប់បានចងសម្ព័ន្ធភាភាពជាមួយគ្នាម្តងរួចមកហើយ ប៉ុន្តែចំណងនៃសម្ព័ន្ធភាពនោះត្រូវបានកើតឡើងតែមួយដង្ហើមចង្រិតប៉ុណ្ណោះ ក៏រលត់រលាយដ៏ឆាប់រហ័សបំផុត ។

បន្ទាប់ពីនោះមកបក្សប្រឆាំងទាំងពីរតែងតែវាយប្រហារដោយការឆ្លើយឆ្លង តាមពាក្យសំដីដាក់គ្នាជាហូរហែរ ។ បក្សប្រឆាំងទាំងពីរតែងតែបង្ហាញនូវភាពត្រឹមត្រូវ និងស្អាតស្អំរបស់គេរៀង១ខ្លួន ។ ជានិច្ចជាកាល បក្ស សម រង្ស៊ី តែងតែវាយប្រហារទៅលើបក្សសិទ្ធិមនុស្សថា ជាអាយ៉ងរបស់បក្សកាន់អំណាច ។ រីឯបក្សសិទ្ធិមនុស្សក៏ធ្លាប់បានវាយប្រហារ និងរិះគន់ចំ១ចំពោះ លោក សម រង្ស៊ី ប្រធានបក្ស សម រង្ស៊ី ថាគ្មានចេតនា និងគ្មានឆន្ទៈក្នុងការរួបរួម ដើម្បីបំរើដល់លិទ្ធិប្រជាធិបតេយ្យដ៏ពិតប្រាកដមួយ ។

ទោះជាយ៉ាងណាក៏ដោយក្រោយពីភ្លៀងមេឃ និងស្រឡះ ហើយចំពោះដំណឹងនៃការរួបរួមគ្នាឡើងវិញរវាងបក្សប្រឆាំងទាំងពីរនេះ បានញុំាងឱ្យមានសាទរ និងគាំទ្រយ៉ាងខ្លាំងពីសំណាក់ប្រជាពលរដ្ឋខ្មែរដែលស្នេហាលទ្ធិប្រជាធិបតេយ្យទាំងក្នុង និងក្រៅប្រទេស ប៉ុន្តែគេនៅពុំទាន់ដឹងថា តើយន្តការនៃការរួបរួមគ្នានោះ អាចនឹងទទួលបានជោគជ័យ ឬបរាជ័យយ៉ាងណានៅឡើងទេ ៕

នាទី ប្រវត្តិសាស្ត្រ

## ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : តឹម វិមល**

**តពីលេខមុន**

.អនុរដ្ឋមន្ត្រី : តាន់ ស៊ិនតូ (ហ្វ)
.រដ្ឋមន្ត្រីយុត្តិធម៌ : ចែម ស្ងួន (ប)
.អនុរដ្ឋមន្ត្រី : អ្នកស្រីសម កន្និដ្ឋា (ហ្វ)
.រដ្ឋមន្ត្រីវប្បធម៌ និងវិចិត្រសិល្បៈ :
នុត ណារ៉ាង (ភ្ជាប់ខ្លួននឹងប)
.អនុរដ្ឋមន្ត្រី : មីសែល ត្រាណោ (ហ្វ)
.រដ្ឋមន្ត្រីការងារ និងសង្គមកិច្ច : ស៊ុយ សែម (ប)
.អនុរដ្ឋមន្ត្រី : កាន់ ម៉ន (ហ្វ)
.រដ្ឋមន្ត្រីសាធារណការ : អ៊ឹង គាត (ហ្វ)
.អនុរដ្ឋមន្ត្រី : ត្រាំ អ៊ីវតិក (ប)
.រដ្ឋមន្ត្រីសុខាភិបាល : ហុង ស៊ុនហ៊ត (ហ្វ)
.អនុរដ្ឋមន្ត្រី : ឈា ថាំង (ប)
.រដ្ឋមន្ត្រីអតីតយុទ្ធជន : ព្រហ្ម នាគរាជ (ម)
.អនុរដ្ឋមន្ត្រី : ឆាយ ថន (ប)
.រដ្ឋមន្ត្រីអប់រំជាតិ : ម៉ុម ជិមហ៊ុយ (ប)
.អនុរដ្ឋមន្ត្រី : គុន គីមតេង (ហ្វ)
.រដ្ឋមន្ត្រីអភិវឌ្ឍន៍ជនបទ :ថាច់ រ៉េន (ព)
.អនុរដ្ឋមន្ត្រី : ឈា សុង (ប)

**២៦កក្កដា ១៩៩៣ :** អ៊ុនតាក់ផ្តើមបើកប្រាក់បៀវត្សរ៍ឱ្យរាជការ និងយោធានៃរាជរដ្ឋាភិបាល -ដែលជាប្រាក់ខែ ខែកក្កដា-សីហា និងកញ្ញា ។ នៅក្នុងសិក្ខាសាលាមួយលោករដ្ឋមន្ត្រីថ្មីនៃក្រសួងហិរញ្ញវត្ថុ សម រង្ស៊ីបានធ្វើសេចក្តីថ្លែងការណ៍ថា "អំពើពុករលួយមិនអាចដើរទៅមុខបានជាមួយនឹងការប្រកួតប្រជែងខាងសេដ្ឋកិច្ចសេរី និងប្រក្រតីទេ" ។

**២៩កក្កដា :** អ៊ុនតាក់ទទួលស្គាល់ថា ក្រុមខ្មែរក្រហមធ្វើការកំទេច ស្ពាន ផ្លូវ ថ្នល់ និងផ្លូវដែកក្នុងល្បឿន២ថ្ងៃម្តង ។

**១សីហា ១៩៩៣ :** កៀ្បរចំណុចកុងត្រូល CTI ខេត្តព្រះវិហារក្រុមខ្មែរក្រហមចេញវាយប្រហារពីដែនដីថៃ យោធាអ៊ុនតាក់ ២១នាក់ ត្រូវបានចាប់ខ្លួន ចំនួន ១១ម៉ោងនៅលើទឹកដីថៃ -នាយទាហានថៃប្រចាំការនៅទីនោះមានការស្និទ្ធស្នាលជាមួយក្រុមខ្មែរក្រហម

**៨សីហា :** យោធារដ្ឋាភិបាលបានបើកការប្រយុទ្ធដ៏ធំមួយទៅលើតំបន់ដែលខ្មែរក្រហមពង្រឹងការកាន់កាប់របស់ខ្លួននៅកំពង់ធំ-ព្រះវិហារ-សៀមរាប-បន្ទាយមានជ័យ ។ គឺការបញ្ចូលកម្លាំងទ័ពបីរួមគ្នាមានទ័ពបក្សប្រជាជន -បក្សហ៊្វុនស៊ិនប៉ិច និងបក្សលោក សឺនសាន ហើយក្នុងរយៈពេលប្រមាណបីសប្តាហ៍បានទទួលជោគជ័យយ៉ាងគួរឱ្យកត់សម្គាល់ -យោធាខ្មែរក្រហមបានត្រូវឱ្យត្រឡប់មកតំបន់ដើមរបស់ខ្លួនដែលកាន់កាប់មុនឆ្នាំ១៩៩៣ -រដ្ឋាភិបាលភ្នំពេញបានកាន់កាប់ព្រំប្រទល់ខ្មែរ-ថៃស្ទើរតែទាំងអស់ ហើយប្រកាសថា "សៀមបានដឹកទ័ពខ្មែរក្រហមពីចំណុចព្រំដែន១ទៅចំណុច១ទៀត" ។ **តទៅលេខក្រោយ**



## ពុទ្ធប្បវត្តិអមដោយរូបភាព

- រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
- បកប្រែជាភាសាអង់គ្លេស ដោយ ហ្សឹត .អេ.លី
- ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
- បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

**២១០-**បន្តិចក្រោយមក អានន្ទក្រាបបង្គំទូលព្រះដ៏មានព្រះភាគថា: បពិត្រព្រះអង្គដ៏ចំរើន ! សូមទ្រង់កុំទាន់ចូលនិព្វានក្នុងកន្លែងដ៏តូចមិនសមរម្យឆ្ងាយពីផ្លូវដូច្នេះអី ។ សូមព្រះអង្គទ្រង់ជ្រើសរើសយកទីក្រុងធំណាមួយក្នុងចំណោមទីក្រុងទាំងឡាយដូចជា ក្រុងរាជគ្រឹះ,សាវត្ថី, ឬក៏ទីក្រុងណាមួយផ្សេងៗទៀត ហើយសឹមទ្រង់យាងចូលនិព្វានក្នុងទីនោះ ។ នៅក្នុងទីកន្លែងទាំងឡាយនោះសម្បូរដោយអ្នកមានអំណាចបុណ្យស័ក្តិ និងទ្រព្យសម្បត្តិដែលសុទ្ធតែជាសាវ័ករបស់ព្រះអង្គ, ពួកគេនឹងទទួលខុសត្រូវលើការចាត់ចែងព្រះសពរបស់ព្រះអង្គ ។

**២១១-**ព្រះពុទ្ធអង្គជាម្ចាស់ទ្រង់ត្រាស់ទៅកាន់អានន្ទថា "ទេ! មិនបានទេអានន្ទ, ចូរអ្នកកុំនិយាយបែបនេះ! ។ អ្នកមិនគួរយល់ថា ទីនេះជាកន្លែងតូចមិនសំខាន់មិនល្អដូច្នោះឡើយ ។ កាលពីយូរលង់កន្លងទៅហើយទីនេះជាទីក្រុងដ៏រុងរឿងមួយ, ជារាជធានីមួយនៃស្តេចក្រព័ត្រាធិរាជ ។ ម្នាលអានន្ទ! ចូរអ្នកទៅកាន់នគរកុសិនារាថ្វាយដំណឹងនេះដល់ព្រះរាជា និងប្រាប់ដល់ប្រជាជនទាំងឡាយក្នុងយប់នេះតែម្តងថា នៅវេលាជិតភ្លឺនៃយប់នេះតថាគតនឹងចូលនិព្វាននៅក្នុងព្រៃនេះ ហើយប្រសិនបើជនទាំងឡាយនោះចង់ឃើញតថាគតសូមឱ្យគេមកមើលតថាគតមុនពេលនោះចុះ" ។ អានន្ទក៏និមន្តទៅកាន់នគរកុសិនារាជាមួយនឹងភិក្ខុទាំងឡាយ ហើយក៏បានថ្វាយដំណឹងនេះដល់ព្រះបាទមល្លៈ និងប្រាប់ដល់ប្រជានុរាស្ត្ររបស់ព្រះរាជាតាមព្រះបន្ទូលនៃព្រះពុទ្ធបរមគ្រូ ។

- Original Illuatration and Naration in Thai by Gunapayuta.
- Translation into English by A Lu.
- Coloring by Yann Fang Lee
- Translation into Khmer by Bhikkhu Kong Am.



**210-**Later, Ananda said to the Buddha: Buddha Please do not enter Nirvana in such improper, out-of the way, small place. Please select one of the large cities such as Rajagrha. Sravasti. Vaisali, or some other city and enter Nirvana there. In those place there are many rich and powerful persons who are your disciples they will bear the responsibility for arrangement of your holy remailns.

**211-**The Buddha said to Annada: No! Ananda, Dont-s say that! You should not think of this place as a small and insignificant and unimportant place. Long ago this was a prosperous metropolis, a capital city, the residence of a Cakravarty King Ananda! Go to Kusinagara and tell king and the people that tonight, during the last watch of the night. the Buddha will enter Nirvana in this forest, and if they wish to, they should come. Ananda went to Kusinagara with serveral bhiksus and told king Malla and his people what the Buddha had said.



# ជោគជតារាសីទាំង 12 ប្រចាំឆ្នាំហោង

ជោគជតាប្រចាំសប្តាហ៍

**ឆ្នាំជូត**
រាល់ការបំពេញការងាររបស់លោកអ្នក ក្នុងរយៈពេលនេះ សុទ្ធតែផ្តល់នូវអត្ថប្រយោជន៍គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀតនោះគម្រោងការដែលបានត្រៀមទុកជាយូរមកហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នាបើនៅឆ្ងាយ ៕

**ឆ្នាំថោះ**
អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្តី គួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

**ឆ្នាំមមី**
លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះវាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕

**ឆ្នាំរកា**
លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានតួសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្អុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ។

**ឆ្នាំឆ្លូវ**
រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះសូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

**ឆ្នាំរោង**
នៅក្នុងរយៈពេលនេះលោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះ ក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិនិងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើតែហាមកុំជួញ ដូរផ្លូវឆ្ងាញប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

**ឆ្នាំមមែ**
រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែមទើបជាការប្រសើរ ៕

**ឆ្នាំច**
លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញគួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕

**ឆ្នាំខាល**
រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នាជាយូរមកហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណងហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

**ឆ្នាំម្សាញ់**
លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

**ឆ្នាំវក**
ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

**ឆ្នាំកុរ**
រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗនាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀបដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

តមកទំព័រទី ៣

## លេខទី១៧-តើទិវាមាតាមានន័យ...

ម៉ែទុក្ខម្ហឹង១សែនឈឺផ្សា
សង្រ្គាមស្រណោះដឹងយ៉ាងណា!
ឬខ្មែរជីវានាទ្រូងព្រៃ? ។

បាកូនក្នុងជួរទ័ពបារាំង
វាយច្បាំងតតាំងយួនស្រុកី
ពេលពពុះទឹកបែកខ្ទាត់ខ្ទាយ

បានាងមានជ័យវិញរដ្ឋា ។
ស្រណោះស្រីខ្មែររង់ចាំប្តី
សង្ឃឹមមានថ្ងៃបានជួបជួន
បើមិនមកទេនាងបីកូន

រង់ចាំជួបជូនក្លាជាថ្ម ។
ឱម៉ែអើយ! ទុក្ខរបស់នារីរង់ចាំប្តីវិលវិញមក
ពីច្បាំងសង្គ្រាមជាញជ័យពិតជាទុក្ខសោជនាដកម្ម

នៅមានតលេខក្រោយ

តមកពីទំព័រទី ៨

## ប្រេសក្តីបនៅវូរប៊ើន...

គឺ២៧ សំឡេង! បានន័យថា បើខ្មែរយើង២៧នាក់ក្នុងចំណោមខ្មែរប្រមាណខ្មែរប្រមាណ៩០០០នាក់ នៅលីនសម្រេចចិត្តមិនទៅបោះឆ្នោតទេនោះ លោក ហុង ណេត ក៏ពុំអាចអង្គុយអាសនៈនៅទីនេះបានដែរ ខ្ញុំធ្វើការពេញ ពេលនៅបីកន្លែង គឺខ្ញុំជាអ្នក Consultant ផង ជាម្ចាស់ហាងថ្មីមួយផង និងជាបេក្ខជនថែមទៀត -ធ្វើជាអ្នកនយោបាយគឺជាការទទួលខុសត្រូវមួយចំពោះមុខសហគមន៍តែចំពោះអ្នកមិនទៅបោះឆ្នោតវិញ អ្នកនយោបាយគេមិននិយាយរកទេ ដូច្នេះការទៅបោះឆ្នោត គឺការសម្តែងមតិដែលគេគោរព បើលោកអ្នកមានបងប្អូននៅតំបន់ដែលខ្ញុំឈរឈ្មោះ សូមណែនាំពីឈ្មោះខ្ញុំផង ហើយសូមឱ្យបោះឆ្នោតឱ្យខ្ញុំ ។

**កែម ស៊ាយ :** ខ្ញុំជាប្រធានគណបក្ស សម រង្ស៊ី ប្រចាំរដ្ឋម៉ាសា-ឈូសែត ខ្ញុំបានទទួលសេចក្តីអញ្ជើញពីខ្មែរផូស ស.រ.អា ខ្ញុំក៏បានណែនាំគ្នាចូលរួមចំនួន២គុ -ថ្ងៃនេះពុំមានអ្វីជារឿងនយោបាយទេ គឺជារឿងសង្គមដែលខ្ញុំយល់ថា ទោះជាមានទស្សនៈយ៉ាងណាក្តីមាននិន្នាការខុសគ្នាក្តី គឺយើងត្រូវរកវិធីគ្រប់បែបយ៉ាង ដើម្បីឱ្យមានការចុះសម្រុងគ្នារួបរួមគ្នាឱ្យបាន ។ ខ្ញុំសង្កេតឃើញថា ខ្មែរយើងនៅមានការបែងចែកគ្នាមើលបំណាំគ្នាពុំសូវចូលគ្នាចុះទេ តែថ្ងៃនេះខ្ញុំឃើញខ្មែរផូសធ្វើបានល្អណាស់ ដោយខ្ញុំឃើញអ្នកស្រី មាយ៉ា ក៏អញ្ជើញមកលោកប្អូន ស ឆៃល ក៏មកចូលរួមឱ្យយោបល់ពីសហគមន៍យ៉ាងស្មើមុខគ្នាដែលសកម្មភាពនេះ គួរតែកើតមានកាន់តែច្រើន ។ ខ្ញុំក៏សូមអំពាវនាវឱ្យទម្លាក់ទំនាស់រវាងគ្នានឹងគ្នាចោលចេញ ហើយចេះអត់ឱនគ្នា ដើម្បីភាពជានាគ្នាត្រឡប់មកវិញបាន ។





**ពិន សំខុន :** ខ្ញុំចង់ឆ្លើយបញ្ជាក់នឹងលោក គិម ស៊ាយ ថា ការស្វែងរកភាពជានាគ្នា គឺស្ថិតនៅលើភាពសុច្ចរិត យុត្តិធម៌ហើយ បើជានាគ្នាលើផ្លូវខិលខូចក៏វាមិនអាចស្ថិតស្ថេរដែរ -ដូច្នេះសង្គមយើងត្រូវការភាពត្រឹមត្រូវ ដើម្បីចងគ្នាឱ្យបានរឹងមាំ ហើយម្យ៉ាងទៀត សម្រាប់ខ្មែរផូស ថ្វីត្បិតតែមានរឿងមិនល្អជាច្រើនបានត្រូវលាតត្រដាងជាសាធារណៈយើងប្រកាន់យកមាគ៌ាមួយថា "ទោះជារឿងល្អក្តីអាក្រក់ក្តីយើងសរសេរតែការពិត" ។ ព្រោះការពិតជាកញ្ចក់ឆ្លុះបញ្ចាំងរូបភាពឥតក្លែងក្លាយដែលគេអាចដោះស្រាយបាន ។

**សេង លីគង់ :** ប្រធានគណកម្មាធិការក្រុងខ្មែរនៅឡូវែល ខ្ញុំមានមោទនភាពដែលបានមករស់នៅឡូវែល ហើយក្រុងខ្មែរបានត្រូវបង្កើតឆ្នាំ២០១២នេះ យើងត្រូវការខ្មែរផូស ដើម្បីផ្សាយឱ្យបានជ្រួតជ្រាបពីក្រុងខ្មែរ ហើយធ្វើឱ្យគេចង់មកលេងក្រុងយើង ហើយទិញដូរទំនិញនានារបស់ក្រុងយើង -យើងត្រូវការអស់លោកអ្នកទាំងអស់ជ្រោមជ្រែងយើង យើងត្រូវការលោកគណក្រុមប្រឹក្សាក្រុង យើងត្រូវការលោក Councelor ដូចលោក ហុង ណេត ជាដើម្បីធ្វើឱ្យគេស្គាល់តម្លៃនៃក្រុងខ្មែរយើង ដូច្នេះបើគេមានការលំបាកទៅស្រុកខ្មែរមិនបានយើងយកស្រុកខ្មែរមកទីនេះវិញ ។



**សុបិន ពិន :** ពិធីយើងបានចប់ជាស្ថាពរ សូមអញ្ជើញពិសារភោជនាហារបន្តដោយរីករាយ ហើយនាងខ្ញុំសូមអរគុណចំពោះវត្តមានរបស់លោកអ្នកទាំងអស់ ៕



# ភ្នំជីសូរ ជារមណីយដ្ឋាន ទេសចរណ៍ប្រវត្តិសាស្ត្រ

ប្រាសាទភ្នំជីសូរមានទីតាំងស្ថិត នៅលើភ្នំជីសូរ ភូមិស្លា ឃុំរវៀង ស្រុកសំរោង ខេត្តតាកែវ ។ បើយើងធ្វើដំណើរតាមរថយន្តពីភ្នំពេញ តាមផ្លូវជាតិលេខ២កាត់តាមស្រុកបាទី និងប្រាសាទនាងខ្មៅមានចម្ងាយ៦២គីឡូម៉ែត្រ ដោយត្រូវប្រើរយៈពេលប្រហែលមួយម៉ោងរួចបត់ចូលតាមផ្លូវលំមួយមានចម្ងាយ៥គីឡូម៉ែត្រពីផ្លូវជាតិតែបើធ្វើដំណើរពីទីរួមខេត្តមានចម្ងាយ២៧គីឡូម៉ែត្រ ។

គេអាចមើលឃើញភ្នំជីសូរតាំងពីច្រកចូលទៅភ្នំតាម៉ៅនៅតាមផ្លូវ ជាតិលេខ២ឆ្ពោះទៅទិសខាងត្បូង ប៉ុន្តែភ្ញៀវទេសចរត្រូវបន្តដំណើរប្រមាណ ២៥គីឡូម៉ែត្រទើបទៅដល់ទីនោះ ។ នៅលើភ្នំជីសូរមានប្រាសាទបុរាណមួយ ថ្វីត្បិតតែមានសភាពបាក់បែកភាគច្រើន ប៉ុន្តែវាមានលក្ខណៈល្អផ្តាច់ លើសប្រាសាទនានានៃតំបន់នេះ ។ ពីកំពូលភ្នំនេះគេអាចគយគន់មើលទេសភាពវាលស្រែនៅក្នុងខេត្តតាកែវដ៏ល្អប្រណីតគ្រប់ទិសទី ។

ប្រាសាទភ្នំជីសូរបានស្ថាបនាលើខ្នងភ្នំមួយមានកម្ពស់៣៨០ម៉ែត្រ នៅដើមសតវត្សរ៍ទី១១ (១០០២-១០៥០) ដោយព្រះបាទសូរ្យវរ្ម័នទី១សម្រាប់ឧទ្ទិសដល់ព្រហ្មញ្ញសាសនា ។ ប្រាសាទនេះសាងសង់អំពីថ្មភក់ និងលីប៉ូនីតមានបណ្តោយ៦០ម៉ែត្រទទឹង ៥០ម៉ែត្រ និងមានថែវ២ជាន់ព័ទ្ធជុំវិញ ។ ថែវ ទី២មានទំហំតូចជាងថែវទីមួយ និងនៅចំកណ្តាលមានទីសក្ការៈមួយ ដែលសំខាន់ ហើយមានទ្វារឆ្លាស់ពីរខាងក្នុងមានរូបបដិមាមួយអង្គធ្វើអំពីឈើ ។ ដោយឡែកគេប្រទះឃើញក្បាច់ចម្លាក់យ៉ាងល្អប្រណីតនៅផ្តែរ និងសសរពេជ្រ ។

គេនិយមឡើងភ្នំជីសូរតាមជណ្តើរថ្មខាងលិចដែលមានចំនួន៣៩០កាំ ហើយចុះតាមជណ្តើរខាងត្បូង ដែលមានចំនួន ៤០៨កាំ ។ នៅ ចំពីមុខប្រាសាទមានខ្លោងទ្វារ និងមានជណ្តើរមួយទៀត សាងសង់តាំងពីសម័យកសាងប្រាសាទ ដែលភ្ជាប់ទៅនឹងប្រាសាទសែនឆ្នស់ និងប្រាសាទ សែនភូវ៉ាំង និងទន្លេអុំដែលជាបឹងដ៏ពិសិដ្ឋកាលពីអតីតកាលសម្រាប់ធ្វើពិធីងូតទឹកលាងបាបតាមលទ្ធិព្រហ្មញ្ញសាសនា ។ ក្រៅពីនេះនៅមានប្រាសាទជាច្រើនទៀត ដែលស្ថាបនាតាមសម័យកាលខុសៗគ្នានៅលើទីលានថ្មមួយដ៏ធំទូលាយបែរមុខទៅទិសខាង កើតនិងពាយ័ព្យមានបណ្តោយប្រវែង១០០ម៉ែត្រ និងទទឹង៨០ម៉ែត្រ ។ ប៉ុន្តែអ្វីដែលគួរឱ្យសោកស្តាយ គឺមួយផ្នែកធំនៃប្រាសាទភ្នំជីសូរត្រូវបានខូចខាត ។

នៅប៉ែកខាងត្បូងនៃប្រាសាទមានព្រះវិហារពុទ្ធសាសនាសង់ថ្មីមួយ និងនៅខាងក្រោយមានសាលាធម្មសភាមួយខ្នងដែលមានកុដិព្រះសង្ឃ និងមានទីសក្ការៈតូចមួយទៀត ហើយមានអាងទឹកចំណាស់មួយធ្វើពីបេតុងជាថ្នាក់ៗ ។

ភ្នំជីសូរជារមណីយដ្ឋានទេសចរណ៍ប្រវត្តិសាស្ត្ររបស់ខេត្តតាកែវ ។ មណ្ឌលនេះបាន និងកំពុងឆ្លុះបញ្ចាំងនូវប្រាសាទបុរាណដែលជាកេរដំណែលវប្បធម៌អរិយធម៌បេតិកភណ្ឌជាតិខ្មែរគួបផ្សំនឹងទស្សនីយភាពធម្មជាតិ និងសមិទ្ធផលសង្គមផ្សេងៗទៀត ក្នុងនោះមានជាអាទិ៍ គឺវត្តភ្នំជីសូរ។ ក្រៅពីនេះគេឃើញមានរូងវិមានចន្ទស្ថិតនៅប្រមាណ១៥០ម៉ែត្រពីខាងត្បូងប្រាសាទភ្នំជីសូរ ។ រូងភ្នំធម្មជាតិនេះមានតាំងពីយូរយារណាស់មកហើយ។ វាជាទីស្ងាត់សម្រាប់ពួកសមណព្រាហ្មណ៍តាំងសមាធិ ឬសម្រាប់ធ្វើធុតង្គដើរចង្ក្រមភាវនាធម៌ ។ កាលពីសម័យសង្គ្រាមក្នុងឆ្នាំ ១៩៧០មានការទម្លាក់គ្រាប់បែកយ៉ាងខ្លាំងបណ្តាលឱ្យរូងនេះបិទជិតដោយដុំថ្មធំៗមិនអាចចេញចូលទៀតបានឡើយ ។

ក្រៅពីប្រាសាទគេឃើញមានវត្តភ្នំជីសូរបានកសាងឡើងនៅក្នុងឆ្នាំ ១៩១៧ ដែលមានចៅអធិការវត្តគ្រប់គ្រងតាំងពីដើមរៀងមកមានចំនួន៥អង្គ ។ វត្តនេះត្រូវបានបំផ្លាញខ្ទេចខ្ទីក្នុងសង្គ្រាមឆ្នាំ១៩៧០ហើយចាប់ផ្តើមកសាងជាថ្មីក្នុងឆ្នាំ១៩៧៩ តរៀងមក ៕



## សមាគមគាំទ្រត្រួសារខ្មែរ នឹងខ្មែរជួស ស.រ.អា



*អ្នកឯកទេសខាងរុករកបុរាណវត្ថុក្រោមដីបណ្ឌិត ធុយ ចាន់ធួន ខាងបុរាណវិទ្យាមកពីទីក្រុងភ្នំពេញនឹងធ្វើសេចក្តីរាយការណ៍ស្តីអំពីការរកឃើញដ៏ធំមួយដែលនឹងបំភ្លឺពីប្រវត្តិកម្ពុជាឲ្យមានការជាក់ច្បាស់ជាពេលមុនៗពី"អាថ៌កំបាំងនៃអង្គរវត្ត" ដ៏រុងរឿងរបស់ខ្មែរ ។ ភស្តុតាងដែលខ្វះខាតគ្រប់កន្លែងនឹងគ្រប់ជំនាន់នៃប្រវត្តិសាស្ត្រកម្ពុជាបានត្រូវផ្តើមបំពេញដោយការរុករកតាមបែបវិទ្យាសាស្ត្រហើយបណ្ឌិត ធុយ ចាន់ធួន នឹងមករាយការណ៍ ជូនហ្វីឡា ដែលហ្សេនៅ :*

***Wat Bra buddha Ransy**
619 Ritner Street
Philadelphia, PA 19148
* Tuesday July 17th, 2012
*from 4 to 7PM

You are invited to attend the meeting regarding the "Secret of Angkor Wat" with Dr. THUY CHANTHUON Archeologist, Deputy Director Institute of Culture & Fine Art in Cambodia.

Contacts : : Pin Samkhon Roger 267-770-6982
Soben pin 267-253-3947
Mao Man 215-336-2562
Tray Holl 215-435-9733